5 January 2023

💡 *Tips of the Week*




# (Believer in Islam, Part I)

(Believer in Islam, Part I)

إِنَّمَا الْمُؤْمِنُونَ الَّذِينَ آمَنُوا بِاللَّهِ وَرَسُولِهِ ثُمَّ لَمْ يَرْتَابُوا وَجَاهَدُوا
بِأَمْوَالِهِمْ وَأَنْفُسِهِمْ فِي سَبِيلِ اللَّهِ ۚ أُولَٰئِكَ هُمُ الصَّادِقُونَ
سورة الحجرات:15

តាមពិតបណ្ដាអ្នកដែលមានជំនឿគឺអ្នកដែលបានជឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ បន្ទាប់មកពួកគេមិនសង្ស័យ ហើយបានតស៊ូក្នុងមាគ៌ារបស់អល់ឡោះ ដោយទ្រព្យសម្បត្តិរបស់ ពួកគេ និងខ្លួនប្រាណរបស់ពួកគេ។ អ្នកទាំងនោះជាអ្នកដែលមាន ជំនឿយ៉ាងពិតប្រាកដ។

يَا أَيُّهَا الَّذِينَ آمَنُوا آمِنُوا بِاللَّهِ وَرَسُولِهِ وَالْكِتَابِ الَّذِي نَزَّلَ عَلَىٰ رَسُولِهِ وَالْكِتَابِ الَّذِي أَنْزَلَ مِنْ قَبْلُ ۚ وَمَنْ يَكْفُرْ بِاللَّهِ وَمَلَائِكَتِهِ وَكُتُبِهِ وَرُسُلِهِ وَالْيَوْمِ الْآخِرِ فَقَدْ ضَلَّ ضَلَالًا بَعِيدًا
سورة النساء:136

ឱបណ្ដាអ្នកដែលមានជំនឿ! ចូរពួកអ្នកជឿលើ អល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ និង គម្ពីរដែលទ្រង់បានបញ្ចូលទៅលើអ្នកនាំសាររបស់ទ្រង់ ហើយនិងគម្ពីរដែលទ្រង់បាន បញ្ចុះពី មុនមក។ អ្នកណាដែលប្រឆាំងនឹងអល់ឡោះនិងបណ្ដាម៉ាឡាអ៊ីកាត់ របស់ទ្រង់ និង បណ្ដាគម្ពីរបស់ទ្រង់ និងបណ្ដាអ្នកនាំសាររបស់ទ្រង់ និងថ្ងៃបរលោក អ្នកនោះពិតជាបានវង្វេង(ពីមាគ៌ាដែលត្រឹមត្រូវ) ដ៏សែនឆ្ងាយ។

إِنَّمَا الْمُؤْمِنُونَ الَّذِينَ إِذَا ذُكِرَ اللَّهُ وَجِلَتْ قُلُوبُهُمْ وَإِذَا تُلِيَتْ عَلَيْهِمْ آيَاتُهُ زَادَتْهُمْ إِيمَانًا وَعَلَىٰ رَبِّهِمْ يَتَوَكَّلُونَ
سورة الأنفال:2

តាមពិតបណ្ដាអ្នកដែលមានជំនឿនោះ គឺជាបណ្ដាអ្នកដែល នៅពេលមានគេរំលឹកចំពោះ អល់ឡោះ ចិត្តរបស់ពួកគេមានការភ័យ ខ្លាចញាប់ញ័រ។ ហើយនៅពេលដែលមានគេសូត្រ អាយ៉ាត់ៗរបស់ ទ្រង់ឱ្យពួកគេស្ដាប់ វាធ្វើឱ្យពួកគេកាន់តែមានជំនឿថែមទៀត។ ហើយ ចំពោះម្ចាស់របស់ពួកគេតែមួយគត់ ដែលពួកគេប្រគល់ការ ទុកចិត្ត។

~mu᾽min ជាអ្នកមានជំនឿបុរស mu᾽mina ជាអ្នកមានជំនឿស្ត្រី

~mu᾽min ជាពាក្យដែលត្រូវបានប្រើនៅក្នុងគម្ពីរដើម្បីពណ៌នាអំពីអ្នកមានជំនឿចំពោះ ព្រះតែមួយគត់ (monotheistic believers)

~mu᾽min ត្រូវបានគម្ពីរលើកឡើងជាឃ្លាថា ’ឱបណ្ដាអ្នកដែលមានជំនឿ!’ (يا أيها الذين آمَنُوا)

~mu᾽min ត្រូវបានលើកឡើងក្នុងគម្ពីរមានចំនួន 589 ដង ប្រហែល 589 អាយ៉ាត់ ។

~al-Quran បានពណ៌នាអំពីជំនឿភាគច្រើនទាក់ទងនឹងបទបញ្ញាត្តិ និងការហាមឃាត់ សំរាប់អ្នក mu᾽min ក៏ដូចជា ការលើកសរសើរពួកគេផងដែរ ។

~Ihsan គឺជាដំណាក់កាលខ្ពស់បំផុតរបស់ mu᾽min ដែលត្រូវបានគេហៅថា Muhsin

~mu᾽min ចំពោះអល់ឡោះជាម្ចាស់តែមួយគត់ ដែល ពួកគេប្រគល់ការទុកចិត្ត

~mu᾽min ពួកគេគោរពសក្ការៈមកចំពោះអល់ឡោះតែមួយគត់ ដោយពួកគេមិនធ្វើស្ហ៊ីរិក នូវប្រការណាមួយឡើយ

~mu᾽min ជាជនដែលមានជំនឿនឹងអល់ឡោះ និងអ្វីដែលព្រះបញ្ចុះមក

~mu᾽min ជាជនដែលមានជំនឿលើអល់ឡោះជាម្ចាស់ និងអ្នកនាំសារព្រះ
(al-Quran 24:62)

~mu᾽min ជាជនដែលយល់ព្រមទទួលទាំងស្រុងចំពោះ

Caption

អល់ឡោះជាម្ចាស់ (នៃឆន្ទៈរបស់ព្រះ Will of Allah) និងមានជំនឿរឹងមាំនៅក្នុងចិត្តរបស់ពួកគេ

~mu᾽min ជាអ្នកមានគោលជំនឿម៉ុតមាំ

~mu᾽min ជាអ្នកមានជំនឿនឹងអល់ឡោះ ម៉ាឡាអីកាត់ គម្ពីរខព្រះ អ្នកនាំសារព្រះ ថ្ងៃជំនុំជំរះ និងជោគវាសនាល្អ ឬអាក្រក់

~mu᾽min ជាអ្នកដែលជឿលើគម្ពីរដែលបញ្ចុះទៅឲ្យអ្នកនាំសារព្រះ និងគម្ពីរដែលបានបញ្ចុះពីមុនមក ។
(al-Quran 4:136)

~muʾmin ជាអ្នកដែលជឿលើអល់ឡោះ និងអ្នកនាំសាររបស់ទ្រង់ និងគម្ពីរដែលទ្រង់បាន បញ្ចុះទៅលើអ្នកនាំសាររបស់ទ្រង់ ហើយនិងគម្ពីរដែលទ្រង់បានបញ្ចុះពី មុនមក ។
(al-Quran 4:136)

~muʾmin ជាអ្នកដែលប្រតិបត្តិតាមអល់ឡោះ និងប្រតិបត្តិតាមអ្នកនាំសារ ហើយនិង មេដឹកនាំរបស់ ពួកគេ ។
(al-Quran 4:59)

~muʾmin ជាជនដែលសូត្រគម្ពីរ al-Quran

~muʾmin ជាជនដែលសូត្រគម្ពីរ al-Quran និងយល់អត្ថន័យនៃគម្ពីរ

~muʾmin ជាជនដែលសូត្រគម្ពីរ al-Quran និងអនុវត្តតាមគម្ពីរ

~muʾmin ជាជនដែលចេះស្រឡាញ់គ្នាទៅវិញទៅមក
(Riyad as-Salihin 378)

Caption

~muʾmin ជាជន Tawakkal នឹងអល់ឡោះ ដោយពួកគេ សូត្រថា حَسْبُنَا اللهُ وَنِعْمَ الوَكِيلُ (អល់ឡោះគ្រប់គ្រាន់ហើយសំរាប់ពួកយើង ហើយទ្រង់គឺជាអ្នកដែលត្រូវគេពឹង ផ្អែកដ៏ល្អបំផុត)
(Riyad as-Salihin 76)

~muʾmin ជាបងប្អូននឹង muʾmin មួយទៀត
(Al-Adab Al-Mufrad 239)

~muʾmin ជាបងប្អូននឹង muʾmin ដូច្នេះមិនស្របច្បាប់ទេសំរាប់ muʾmin ធ្វើការទិញ អ្វីមួយដោយផ្តល់តំលៃថ្លៃជាង muʾmin ផ្សេងទៀត
(Sahih Muslim 1414)

~muʾmin ជាអ្នកដែលទទួលបានសុខសន្តិភាព និងការចង្អុលបង្ហាញនៅពេលពួកគេមិនយកជំនឿ របស់ពួកគេលាយឡំនឹងអំពើស្ទីរិកទេនោះ
(al-Quran 6:82)

~muʾmin ជាអ្នកដែលមិនផ្អែតផ្អន់នឹងទង្វើល្អឡើយរហូត ពួកគេបានដល់ដំណាក់កាលនៃឋានសួគ៌
(Riyad as-Salihin 1386)

~muʾmin ជាកញ្ចក់ឆ្លុះបង្ហាញអ្នក muʾmin ដទៃទៀត
(Sunan Abi Dawud 4918)

~muʾmin ជាបងប្អូនរបស់អ្នក muʾmin ដោយការពារបងប្អូនពួកគេ ពីក្រោយខ្នង ឬនៅពេលមានការអវត្តមានណាមួយ ។

~muʾmin ជាបងប្អូនរបស់អ្នក muʾmin ដោយជួយបងប្អូន ពួកគេពីការបាត់បង់ ឬការភ័ន្តច្រឡំផ្សេងៗ ។

Caption

(Sunan Abi Dawud 4918)

~muʾmin គឺជាមនុស្សមានសីលធម៌ជាងគេ ឬ muʾmin
ដែលមានជំនឿពេញលេញជាងគេក្នុងចំណោមអ្នក muʾmin ទាំងឡាយគឺជាអ្នកដែលមានសីលធម៌ល្អប្រសើរជាងគេ
(Riyad as-Salihin 628)

~muʾmin គឺជាអាណាព្យាបាលគ្នាទៅវិញទៅមករវាង muʾmin ប្រុស និងស្ត្រីដោយពួកគេប្រើគ្នាអោយធ្វើល្អ និងហាមឃាត់គ្នាពីប្រការអាក្រក់ ។
(al-Quran 9:71)

~muʾmin គឺជាជនដែលមានជំនឿថាការបញ្ចុះទឹកភ្លៀង
កើតមកពីក្តីមេត្តាករុណាមកពីអល់ឡោះជាម្ចាស់ ឯអ្នកគ្មានជំនឿវិញពួកគេនិយាយថា ទឹកភ្លៀងបញ្ចុះមកដោយសារ
ផ្កាយនេះផ្កាយនោះ ដោយពួកគេមានជំនឿចំពោះផ្កាយ ។
(Riyad as-Salihin 1731)

~muʾmin គឺជាជនដែលត្រូវគេបញ្ចូលក្នុងឋានសួគ៌ ។
រ៉ស៊ូលុលឡោះ បានស្បថថា ពួកអ្នកនឹងមិនអាចចូលឋាន សួគ៌ឡើយលុះត្រាតែពួកអ្នកមាន ជំនឿ ហើយពួកអ្នកគ្មានជំនឿឡើយលុះត្រាតែ ពួកអ្នកស្រលាញ់គ្នា ។
(Riyad as-Salihin 378)

~muʾmin គឺជាជនដែលមានការស្រឡាញ់គ្នាទៅវិញ ទៅមកក្នុងបុព្វហេតុព្រះ ហើយ ប្រការដែលធ្វើឲ្យមានការស្រឡាញ់គ្នានោះគឺ ការអោយសាឡាម(គារវកិច្ច) គ្នា ទៅវិញទៅមកជាដើម ។

Caption

~muʾmin គឺជាមនុស្សសាមញ្ញ និងចិត្តទូលាយ
(Sunan Abi Dawud 4790)

~muʾmin គឺជាអ្នកដែលស្រឡាញ់ចូលចិត្តពួកអាន់ស្វ៉ារ(الأنصار) ហើយពួកពុតត្បុតជាអ្នក ស្អប់ពួកអាន់ស្វ៉ារ(الأنصار)
(Riyad as-Salihin 380)

~muʾmin គឺជាជនដែលមិនចាកចេញពីអង្គប្រជុំមួយដោយ គ្មានការសុំអនុញ្ញាតិអំពីមេ អង្គប្រជុំនោះទេ
(al-Quran 24:62)

~mu᾿min គឺជាអ្នកតស៊ូដោយដៃ ឬអណ្តាត ឬចិត្តរបស់ ពួកគេជាមួយពួកអ្នកដែលស្នងត្រកូលរបស់ណាពីៗ ឬពួកអ្នកដើរ តាមណាពីៗដោយសារពួកគេនិយាយនូវអ្វីដែលពួកគេមិនធ្វើ ហើយធ្វើនូវអ្វីដែលគេមិនប្រើ ហើយអ្នកមិនតស៊ូនឹងពួកគេទេ គឺគ្មានជំនឿសូម្បីប៉ុនគ្រាប់ស្ពៃ

(Riyad as-Salihin 185)

~mu᾿min គឺជាមនុស្សដែលល្អជាងគេ គឺពួកដែលតស៊ូទាំង ខ្លួនប្រាណ និងទ្រព្យសម្បត្តិរបស់ពួកគេក្នុងមាគ៌ារបស់ អល់ឡោះ

~mu᾿min គឺជាជនដែលមានប្រការល្អកើតមានចំពោះគាត់ គាត់ធ្វើការថ្លែងអំណរគុណ(អល់ឡោះផ្តល់ផលបុណ្យអោយគាត់) ដូចនេះ វាជាការប្រសើរ សំរាប់គាត់។ ប្រសិនបើប្រការអាក្រក់កើតមានចំពោះគាត់ គាត់អត់ធ្មត់ (អល់ឡោះក៏ផ្តល់ផលបុណ្យអោយគាត់)។ ដូចនេះវាក៏ជាការល្អប្រសើរមួយសំរាប់ គាត់ ។

~mu᾿min គឺអស្ចារ្យណាស់ ចំពោះការងាររបស់ពួកគេ

Caption

(Riyad as-Salihin 27)

~mu᾿min គឺគ្រប់កិច្ចការរបស់ពួកគេសុទ្ធតែល្អ ហើយគ្មាន អ្នកណាម្នាក់ទទួលបាននោះទេលើកលែងតែ mu᾿min ទើបទទួលបាន ។

~mu᾿min គឺនៅតែជាអ្នក mu᾿min ទោះបីពួកគេប្រព្រឹត្ត អំពើបាបកម្មធំយ៉ាងណាក៏ដោយដោយសារពួកគេបានទទួលស្គាល់ និងពេញចិត្តថា៖

1.អល់ឡោះជាម្ចាស់តែមួយគត់

2.អ៊ីស្លាមជាសាសនារបស់យើង

3.ណាពីម៉ូហាំម៉ាត់ជាអ្នកនាំសារព្រះ

~mu᾽min ដែលល្អបំផុតជាងគេ (ក្នុងផ្នែកជំនឿ) គឺជាជន ដែលមានលក្ខណៈអត្តចរិកល្អជាងគេក្នុងចំណោមពួកគេ ។
(Sunan Abi Dawud 4682)

~mu᾽min ទាំងឡាយ គឺពួកគេដូចជាដៃ ដែលវាប្រឆាំងទៅនឹងសត្រូវរបស់ពួកគេ
Bulugh al-Maram
English translation: Book 9, Hadith 1205

~រ៉សូ៊លុលឡោះ ﷺ បានប្រកាសថាគាត់ជាអ្នក mu᾽min
(Sahih al-Bukhari 4781)

~រ៉សូ៊លុលឡោះ ﷺ ត្រូវបានប្រើឲ្យបន្ទាបខ្លួនចំពោះអ្នក mu᾽min ដែលដើរតាមគាត់

قال اللَّه تعالى: ﴿ واخفض جناحك لمن اتبعك من المؤمنين ﴾ .سورة الشعراء(215)
អល់ឡោះបានមានបន្ទូលថាៈ " ចូរអ្នក(មូហាំម៉ាត់)បន្ទាបខ្លួនរបស់អ្នកចំពោះ អ្នកមានជំនឿដែលប្រតិបត្តិតាមអ្នក"។ (អាស្សូអារ៉ក: ២១៥)

~ការស្រឡាញ់អ្នក mu᾽min ជាផ្នែកមួយនៃគោលជំនឿ

~ការធ្វើឃាតអ្នក mu᾽min ម្នាក់ដោយចេតនា គឺនឹងត្រូវចូលក្នុងឋាននរកជាអមតៈ
(al-Quran 4:93)

~mu᾽min ការកាប់សំលាប់ពួកគេ គឺជាប្រការ Kufr (អជំនឿ)
(Sunan an-Nasa'i 4113)

~mu᾽min ការបង្ខូចកេរ្តិ៍ឈ្មោះពួកគេ គឺជាប្រការអសីលធម៌ និងអំពើអាក្រក់

~mu᾽min ទាំងឡាយ ឬ មេដឹកនាំនៃ mu᾽min ពួកគេអាចជា النَّصِيحَةُ (អ្នកប្រឹក្សាដែលស្មោះស)

(Sunan Abi Dawud 4944)

~mu᾽min សឡ្ញាតស៊ុណ្ណះ 4 Rak'ah នៃសឡ្ញាត ’Asr

(Jami` at-Tirmidhi 429)

~mu᾽min មិនមែនជាអ្នកប្រទេចផ្ដាសា

~mu᾽min មិនមែនជាអ្នកមួលបង្កាច់អ្នកដទៃ

~mu᾽min មិនមែនជាមនុស្សខ្វះសីលធម៌

~mu᾽min មិនបណ្ដុះបង្អាប់គេ

~mu᾽min មិននិយាយពាក្យសំដីអាក្រក់

Caption

~mu᾽min មិនមែនជាមនុស្សដែលគ្មានការខ្មាស់អៀនចិត្ត

Bulugh al-Maram
English translation: Book 16, Hadith 1546

~mu᾽min មិនមែនជាអ្នកបង្ខូចកេរ្តិ៍ឈ្មោះអ្នកដទៃ

(Al-Adab Al-Mufrad 314)

~mu᾽min មិនត្រូវបានផ្តន្ទាទោស ឬសំលាប់ដោយសារជនអជំនឿនោះទេ ដូចជាក្នុង Qiṣāṣ ជាដើម ។

Bulugh al-Maram
English translation: Book 9, Hadith 1205

~mu᾿min មិនត្រូវសំលាប់ពួកគេនោះទេនៅពេលពួកគេ មានកិច្ចសន្យាជាមួយអ្នក Muslim នៅមាននៅឡើយ ។

5 January 2023

~mu᾿min មិនត្រូវធ្វើឃាតកម្ម ឬមនុស្សឃាតទេ
(Sunan Abi Dawud 2769)

~mu᾿min អាចជាមនុស្សកំសាក អាចជាមនុស្សកំណាញ់ តែពួកគេមិនអាចជាមនុស្សភូតកុហកបាននោះទេ
(Muwatta Malik: Book 56, Hadith 19)

~Allah ជាម្ចាស់ដែលប្រទាននៀកម៉ាត់ និងចង្អុលបង្ហាញទៅរកភាពមានជំនឿ Iman ។
(al-Quran 49:17)

~Allah ជាម្ចាស់ដែលបានគាំពារបណ្តាអ្នកដែលមានជំនឿ
(al-Quran 2:257)

~Allah បញ្ចេញមនុស្សលោកពីភាពងងឹត(គ្មានជំនឿ)ទៅកាន់ភាពមានពន្លឺ (មានជំនឿ)

Caption

~Allah បានផ្តល់ការការពារតែមួយ និងស្មើៗគ្នា រវាងអ្នក mu᾿min ឬអ្នក Muslim ទោះបីពួកគេមានឋានៈទាបបំផុតក្នុងចំណោមពួកគេ ។
Bulugh al-Maram
English translation: Book 9, Hadith 1205

~Allah ខឹងសម្បា និងដាក់បណ្តាសាចំពោះជនណាដែលបានធ្វើឃាតអ្នក mu᾿min ហើយនឹងរៀបចំសម្រាប់គេនូវទារុណកម្មដ៏ធ្ងន់ធ្ងរ។
(al-Quran 4:93)

~mu᾿min ហើយនឹង mu᾿min ដូចគ្នាពួកគេដូចជាផ្នែកនៃអគារ មួយដោយពួកគេនិមួយៗជួយគាំទ្រគ្នាទៅវិញទៅមក
(Jami` at-Tirmidhi 1928)

~muʾmin និង muʾmin ដូចជាបងប្អូននឹងគ្នា ដូចនេះគេ មិនអនុញ្ញាតអោយអ្នកមានជំនឿលក់លើការលក់របស់អ្នកមានជំនឿដទៃទៀតនោះទេ ។
(ពាក្យលក់លើការលក់ មានន័យថា នៅ ពេលបុរសម្នាក់សំរេចចិត្តទិញទំនិញរបស់អ្នកលក់ម្នាក់ហើយ អ្នកនិយាយទៅកាន់ អតិថិជននោះថា កុំទិញរបស់គាត់ ទិញរបស់ខ្ញុំវិញ ទំនិញខ្ញុំល្អជាង ឬថោកជាង)
(Riyad as-Salihin 1780)

~muʾmin បរិភោគមានតែពោះមួយ ឯជនអជំនឿបរិភោគ 7 ពោះ ។
(Sahih Muslim 2061 a)

~muʾmin បរិភោគអាហារពេល Sahur ជាមួយផ្លែល្មើ
(Sunan Abi Dawud 2345)

~muʾmin ចាត់ទុកលោកិយនេះគ្រាន់តែជាកន្លែងឃុំឃាំង មួយប៉ុណ្ណោះ
(Riyad as-Salihin 470)

~muʾmin ដែលល្អបន្ទាប់ពីអ្នក muʾmin ដែលបានតស៊ូទាំង ខ្លួនប្រាណ និងទ្រព្យសម្បត្តិរបស់ពួកគេក្នុងមាគ៌ារបស់អល់ឡោះនោះ គឺ muʾmin ដែលគោរព សក្ការៈទៅចំពោះអល់ឡោះ នៅក្នុងជ្រលងភ្នំណាមួយនិងមិនធ្វើអោយមនុស្ស ទទួលរងនូវភាពអាក្រក់ ណាមួយរបស់គាត់ ។
(Riyad as-Salihin 1289)

~muʾmin ដែលកោតខ្លាចអល់ឡោះ នឹងត្រូវបានគេលុប អំពើអាក្រក់ទាំងអស់របស់ពួកគេចេញ
(al-Quran 8:29)

~muʾmin ដែលកោតខ្លាចអល់ឡោះ ពួកគេនឹងចេះបែងចែកខុសត្រូវ ។
(al-Quran 8:29)

~mu᾿min ចំពោះសុបិនរបស់ពួកគេ ស្ទើរតែមិនខុសនៅពេលថ្ងៃបរលោកកាន់តែខិតជិតមក

~mu᾿min ចំពោះសុបិនរបស់ពួកគេ គឺជាផ្នែកមួយនៃ 46 ចំណែកនៃណាពី្វ
(Riyad as-Salihin 839)

~mu᾿min នឹងមានតង់មួយនៅក្នុងឋានសួគ៌ធ្វើអំពីគុជខ្យងដែលមាន បណ្តោយ៧០ម៉ាយទៅលើមេឃ ហើយក្នុងនោះ
មានភរិយា ជាច្រើន ដែលគាត់ទៅរកពួកគេ ហើយពួកគេមើលមិនឃើញគ្នាឡើយ ។
(Riyad as-Salihin 1885)

~mu᾿min នឹងយល់ដឹងអំពីសាសនាយ៉ាងស៊ីជម្រៅដរាបណាពួកគេមិនសំលាប់មនុស្សដោយខុសច្បាប់
(Mishkat al-Masabih 3447)

Caption

~mu᾿min នឹងត្រូវបានអល់ឡោះជាម្ចាស់ធ្វើឱ្យពួកគេមានអំណាចគ្រប់គ្រងនៅលើផែនដីដូចដែលទ្រង់ធ្លាប់បានធ្វើ ឱ្យបណ្តាអ្នកពីមុនពួកគេមានអំណាចគ្រប់គ្រងនោះដែរ។ ហើយទ្រង់ពិតជាធ្វើឱ្យសាសនារបស់ពួកគេមានអានុភាពខ្ពង់ខ្ពស់សម្រាប់ ពួកគេដែលទ្រង់គាប់ចិត្តឱ្យពួកគេ
(al-Quran 24:55)

~mu᾿min នឹងត្រូវបានអល់ឡោះជាម្ចាស់ជំនួសឱ្យ ពួកគេនូវសុខសន្តិភាពបន្ទាប់ពីការភ័យខ្លាចរបស់ពួកគេ

~mu᾿min នឹងត្រូវមានការសាកល្បងជានិច្ចលុះត្រាតែពួកគេគ្មានអំពើបាប
(Jami` at-Tirmidhi 2399)

~muʾmin បើពួកគេចង់ផ្តល់ ឬធានាសុវត្ថិភាពដល់ស្ត្រីម្នាក់ គឺត្រូវបានគេអនុញ្ញាតិ
(Sunan Abi Dawud 2764)

~muʾmin គួរយកទឹក Wudu’ ឲ្យបានលើសខ្នាតដែលគេបានកំណត់ ព្រោះគ្រឿងលំអរបស់អ្នកមានជំនឿ នឹងហៀរទៅដល់ទីកន្លែងដែលគាត់យកទឹក Wudu’ ។
(Riyad as-Salihin 1025)

~muʾmin អ្វីដែលគេរិះគន់បំផុតចំពោះចរិតលក្ខណះរបស់ពួកគេ គឺការព្រហើន
(Al-Adab Al-Mufrad 314)

~muʾmin ព្រលឹងរបស់ពួកគេត្រូវបានគេព្យួរទុកឲ្យនៅមួយកន្លែងដោយសារបំណុលរបស់ពួកគេ រហូតដល់ បំណុលនោះត្រូវបានសងរួច ។
(Jami` at-Tirmidhi 1078)

~muʾmin ជំនឿរបស់ពួកគេមិនធ្លាក់ចុះនោះឡើយដរាបណាពួកគេមិនបានសម្លាប់អ្នកដទៃដោយខុសច្បាប់
(Riyad as-Salihin 220)

~muʾmin ចិត្តរបស់ពួកគេត្រូវបានគេហៅថា الكَرْم
(អាល់ការ៉ម) ។ នៅក្នុងសាសនាអីស្លាមត្រូវបានគេហាម ប្រាម មិនឲ្យហៅទៅចំពោះផ្លែទំពាំងបាយជូរថា អាល់ការ៉ម ។
(Riyad as-Salihin 1740)

~muʾmin ត្រូវបានអល់ឡោះជាម្ចាស់សន្យាចំពោះពួកគេ នូវឋានសួគ៌ដែលមានទន្លេជាច្រើនហូរកាត់ពីក្រោម វា ដោយពួកគេស្ថិតនៅក្នុងនោះជាអមតៈ និងមានលំនៅដ្ឋានជាច្រើនដ៏ល្អប្រណីតនៅក្នុងឋានសួគ៌អាត់និន។
(al-Quran 9:72)

~mu᾽min ត្រូវបានអល់ឡោះជាម្ចាស់សងបំណុលសំរាប់ ពួកគេ នៅពេលពួកគេបាន ស្លាប់ដោយមានបំណុល

~mu᾽min ត្រូវបានអល់ឡោះជាម្ចាស់តបស្នងឲ្យពួកគេនូវ ឋានសួគ៌នៅពេលពួកគេ អត់ធ្មត់ចំពោះការបាត់បង់អ្នកជាទី ស្រឡាញ់របស់ពួកគេនោះ
(Riyad as-Salihin 923, 32)

~mu᾽min ត្រូវបានរ៉ស៊ូលុលឡោះបង្គាប់ឲ្យប្រកាន់ភ្ជាប់នូវ ភក្ដីភាពរបស់ពួកគេ និង ជៀសវាងពីអ្វីដែលគេមិនអនុញ្ញាតដើម្បីអាចបង្កើនគោលជំនឿរបស់ពួកគេបន្ថែមទៀត

~mu᾽min ត្រូវបានរ៉ស៊ូលុលឡោះដកបន្ទុករបស់ពួកគេមួយចំនួន ដូចជាការប្រើប្រាស់ Siwak រៀងរាល់ពេលសឡាត និងការពន្យាពេលសឡាត 'isha រហូតដល់ពាក់កណ្ដាល យប់ជាដើម
(Sunan Abi Dawud 46)

Caption

~mu᾽min ត្រូវបានគេជំរុញទៅលើការប្រយុទ្ធក្នុងសមរភូមិ
(Sahih al-Bukhari 4652)

سورة الأنفال:65
ឱណាពី! ចូរជំរុញបណ្ដាអ្នកដែលមានជំនឿលើការ ប្រយុទ្ធ។ បើក្នុងចំណោមពួកអ្នកមាន គ្នាម្ភៃនាក់ដែលខិតស៊ូអត់ធ្មត់ គឺពួកអ្នកអាចឈ្នះ(ពួកខ្មាំង)ចំនួនពីររយនាក់។ បើ ក្នុងចំណោម ពួកអ្នកមានចំនួនមួយរយនាក់ គឺពួកអ្នកអាចឈ្នះចំនួនមួយពាន់ នាក់ពីពួក ដែលប្រឆាំងដោយសារតែពួកគេជាក្រុមមួយដែលគ្មាន ការយល់ដឹង។

~mu᾽min បានសប្បាយរីករាយអំពីជ័យជំនះរបស់ពួក Romans ទៅលើពួក Persians នា សម័យរ៉ស៊ូលុលឡោះ

ហើយនៅថ្ងៃនោះ(ថ្ងៃដែលរ៉ូមមានជ័យជំនះ)គឺជា ថ្ងៃដែលបណ្ដាអ្នកមានជំនឿសប្បាយរីករាយ

(al-Quran 30:1-5)
(Jami` at-Tirmidhi 3192)

~muʾmin មានខ្លាំង និង muʾmin ខ្សោយ

~muʾmin ខ្លាំង គឺប្រសើរជាង muʾmin ខ្សោយ

~muʾmin ខ្លាំងបានតែប្រែប្រការអាក្រក់អ្នកដទៃដោយដៃរបស់ពួកគេ

~muʾmin ខ្សោយបានតែប្រែប្រការអាក្រក់អ្នកដទៃដោយចិត្តរបស់ពួកគេ

(Riyad as-Salihin 184)

~muʾmin ចាំបាច់ប្រគល់ការទុកចិត្តចំពោះអល់ឡោះ តែមួយគត់

(al-Quran 14:11)

Caption

~muʾmin មានណាពីជាមនុស្សសំខាន់បំផុត គឺសំខាន់ជាង ខ្លួនរបស់ពួកគេផ្ទាល់ទៅទៀត

(al-Quran 33:6)

~muʾmin មានភរិយាៗរបស់ណាពី គឺជាម្ដាយសំរាប់ពួកគេ

~muʾmin មានរ៉ស៊ូលុលឡោះ ﷺ ជាអ្នកផ្គត់ផ្គង់ និងជួយនៅពេលពួកគេអវត្តមាន ឬស្លាប់ជាដើម ។

(Sahih al-Bukhari 4781)

~muʾmin មានរ៉ស៊ូលុលឡោះ ﷺ ជាអ្នកថែរក្សាការពារសាកសពរបស់ពួកគេនៅពេលពួកគេស្លាប់ ។

(Sahih al-Bukhari 2399)

~muʾmin គ្មានអ្វីក្រៅពីសីលធម៌ល្អរបស់ពួកគេឡើយដែលជួយពួកគេទាំងក្នុងលោកិយ និងបរលោកដែលធ្វើឲ្យមានទម្ងន់លើថ្លែកជញ្ជីងរបស់ពួកគេដូចនេះវាជាការងាយស្រួល និងជាអំពើមួយដែលងាយនឹងធ្វើ ។
(Riyad as-Salihin 626)

~muʾmin និងសីលធម៌ល្អរបស់ពួកគេធ្វើឲ្យពួកគេ
អាចឈានដល់ឋានៈរបស់អ្នកបួស និង អ្នកសឡាតនៅពេលយប់ និងធ្វើឲ្យមានទម្ងន់លើថ្លែកជញ្ជីងរបស់ពួកគេនៅថ្ងៃ ជំនុំជំរះ
(Riyad as-Salihin 629)

~muʾmin ម្នាក់នៅពេលត្រូវបានគេសំលាប់ចំពោះអល់ឡោះជាម្ចាស់ គឺវាធំធេងជាងការបាត់បង់ពិភពលោក ទាំងមូល ទៅទៀត ។
(Sunan an-Nasa'i 3988)



~muʾmin ម្នាក់ដែលត្រូវបានគេនិយាយដើមចំពោះមុខអ្នកណាម្នាក់ ហើយគាត់បានជួយការពារអ្នក muʾmin នោះ អល់ឡោះជាម្ចាស់នឹងផ្តល់ផលបុណ្យឲ្យគាត់នៅក្នុងលោកិយនេះ និងថ្ងៃបរលោក ។ បើបុរសនោះមិនបានជួយ ការពារទេនោះអល់ឡោះជាម្ចាស់នឹងផ្តល់ឲ្យពួកគេនូវប្រការ អាក្រក់នៅក្នុងលោកិយនេះ និងថ្ងៃបរលោក ។
(Al-Adab Al-Mufrad 734)

~muʾmin នៅពេលពួកគេស្លាប់ត្រូវបានអល់ឡោះតបស្នង នៃផលបុណ្យរបស់ពួកគេ

~muʾmin នៅពេលពួកគេស្លាប់ត្រូវបានអល់ឡោះសង
បំណុលរបស់ពួកគេ

~muʾmin នៅពេលពួកគេស្លាប់ត្រូវបានម៉ាឡាអ៊ីកាត់ដក ព្រលឹងពួកគេដោយស្រួល

~mu᾽min នៅពេលពួកគេស្លាប់ និងមានទ្រព្យសម្បត្តិបន្សល់ទុកដូចនេះគ្រួសាររបស់ពួកគេជាអ្នកស្នងមរតកនោះ ។

~mu᾽min នៅពេលពួកគេស្លាប់ បើមានបំណុល ឬមានកូនចៅដែលគ្មានទីពឹង គឺមានរ៉សូលុលឡោះជាអ្នកសង បំណុល និងមើលថែរក្សាកូនចៅរបស់ពួកគេ ។
(Sahih al-Bukhari 4781)

~mu᾽min នៅពេលពួកគេស្លាប់សពរបស់ពួកគេនៅផ្សារភ្ជាប់នឹងបំណុលរបស់គាត់រហូតដល់ពេលគេសងជំនួសគាត់
ដូច្នេះត្រូវធ្វើការរួសរាន់ក្នុងការសងបំណុល
(Riyad as-Salihin 943)

~mu᾽min នៅពេលពួកគេស្លាប់ គឺមានទ្បើងញើសនៅលើថ្ងាសរបស់ពួកគេ
(Sunan an-Nasa'i 1828)

~mu᾽min នៅពេលពួកគេស្លាប់ គឺមានទ្បើងញើសនៅលើ ចិញ្ចើមរបស់ពួកគេ
Caption
(Jami` at-Tirmidhi 982)

~mu᾽min នៅពេលមានគេរំលឹកចំពោះអល់ឡោះ ចិត្ត របស់ពួកគេមានការភ័យ ខ្លាចញាប់ញ័រ

~mu᾽min នៅពេលដែលមានគេសូត្រអាយ៉ាត់ៗឱ្យពួកគេស្តាប់ វាធ្វើឱ្យពួកគេកាន់តែមានជំនឿថែមទៀត

~mu᾽min នៅពេលពួកគេមានជំងឺត្រូវបានអល់ឡោះជាម្ចាស់អភ័យទោសអំពើបាបរបស់ពួកគេដោយសារជំងឺ របស់ពួកគេ
(Al-Adab Al-Mufrad 508)

~muʾmin ស្វែងរកចំណេះដឹង

سورة الزمر:9
ចូរអ្នក (មូហាំម៉ាត់)ពោលថា៖ តើបណ្ដាអ្នកដែលចេះដឹង និងអ្នកដែល មិនចេះដឹងស្មើគ្នាដែរឬទេ? ពិតប្រាកដណាស់ មានតែបញ្ញាជន ទាំងឡាយប៉ុណ្ណោះដែលចេះពិចារណា។

~muʾmin មិនត្រូវស្អប់ខ្ពើមភរិយានោះទេ ។ ប្រសិនបើមិនពេញចិត្តនឹងចរិតលក្ខណៈណាមួយរបស់នាងចូរពេញចិត្ត នឹងចិតលក្ខណៈផ្សេងៗទៀតរបស់នាង ។
(Riyad as-Salihin 275)

~muʾmin មិនត្រូវអោយសត្វទិចនៅក្នុងរន្ធតែមួយចំនួនពីរដងឡើយ
(Riyad as-Salihin 1834)

~muʾmin មិនត្រូវដណ្ដឹងស្ត្រីលើ អ្នក muʾmin បាន ដណ្ដឹងរួចឡើយ លើកលែងតែត្រូវបានអ្នកដំបូងនោះបោះបង់ចោលសិនទើបត្រូវគេអនុញ្ញាតិ
(Riyad as-Salihin 1780)
Caption

~muʾmin មិនត្រូវស្នើសុំភ្ជាប់ពាក្យស្ត្រីដែល muʾmin ម្នាក់កំពុងស្នើរសុំលើកលែងតែ muʾmin ទីមួយនោះបានបោះបង់ជាមុនសិន
(Sahih Muslim 1414)

~muʾmin ត្រូវបានគេសាកល្បងទៅលើ ខ្លួនគេផ្ទាល់ កូនចៅ និងទ្រព្យសម្បត្តិរបស់ពួកគេ

~muʾmin ចំពោះគ្រឿងស្រវឹងត្រូវបានគេហាមឃាត់លើពួកគេ
(Sunan Ibn Majah 3389)

~mu᾿min ចំពោះ God's jealousy គឺជាឥទ្ធិពលមួយធ្វើឲ្យអ្នក mu᾿min មិនគួរប្រព្រឹត្ត អ្វីមួយដែលអល់ឡោះបានហាមឃាត់នោះទេ ។ ហើយអល់ឡោះច្រណែន ហើយអ្នកមាន ជំនឿច្រណែន ។

(Jami` at-Tirmidhi 1168)
(Mishkat al-Masabih 3310)

~mu᾿min ចំពោះអល់ឡោះនិងថ្ងៃបរលោក មិនត្រូវជិះសត្វ ពាហនៈណាដែលជាកម្មសិទ្ធិ អច្ឆិនទ្រព្យ (booty of war) របស់អ្នកអ៊ីស្លាមនោះទេ ហើយដាក់វាទៅវិញនៅពេលវា ស្មោកគ្រោក ហើយចំពោះសំលៀបំពាក់ណាដែលជាកម្មសិទ្ធិអច្ឆិនទ្រព្យ (booty of war) របស់អ្នកអ៊ីស្លាមមិនត្រូវពាក់នោះទេ ឬដាក់វាទៅវិញនៅពេលបានពាក់រួច ។

Bulugh al-Maram
(English translation: Book 11, Hadith 1336)

~mu᾿min ចំពោះអល់ឡោះនិងថ្ងៃបរលោក គឺពួកគេ និយាយពាក្យសំដីល្អៗ និងនៅ ស្ងៀម(ប្រសិនបើគ្មានពាក្យល្អនិយាយ)"

(Riyad as-Salihin 1511)

~mu᾿min ចំពោះអល់ឡោះនិងថ្ងៃបរលោក មិនត្រូវអនុញ្ញាតិឲ្យប្រពន្ធមុជទឹកនៅ Hammam (កន្លែងមុជទឹកសាធារណៈ) នោះទេ

(Jami` at-Tirmidhi 2801)

~mu᾿min ចំពោះអល់ឡោះនិងថ្ងៃបរលោក មិនត្រូវចូល មុជទឹកនៅ Hammam ដោយ គ្មាន Izar (កន្សែងរុំផ្នែកខាងក្រោម)

~mu᾿min ចំពោះអល់ឡោះនិងថ្ងៃបរលោក មិនត្រូវអង្គុយនៅកន្លែងដែលគេលក់ស្រា នោះទេ

~muʾmin ចំពោះអល់ឡោះនិងថ្ងៃបរលោក ពួកគេជាអ្នក ផ្តល់កិត្តិយសដល់ភ្ញៀវ
(Riyad as-Salihin 706)

~muʾmin ចំពោះអល់ឡោះនិងថ្ងៃបរលោក ពួកគេជាអ្នកផ្សារភ្ជាប់ចំណងខ្សែលោហិត
(Riyad as-Salihin 706)

~muʾmin ចំពោះអល់ឡោះនិងថ្ងៃបរលោក ពួកគេជាអ្នកនិយាយស្តីល្អ ឬពួកគេនៅស្ងៀម ។
(Riyad as-Salihin 706)

~muʾmin ចំពោះអល់ឡោះនិងថ្ងៃបរលោក ពួកគេជាអ្នកផ្តល់កិត្តិយសដល់ភ្ញៀវតាមសិទ្ធិរបស់គាត់ ។ សិទ្ធិរបស់ភ្ញៀវ គឺផ្តល់កិត្តិយសមួយថ្ងៃ មួយយប់ ហើយការទទួលភ្ញៀវគឺចំនួនបីថ្ងៃ បើលើស ពីនេះ គឺជាការបរិច្ចាគទាន ។
(Riyad as-Salihin 707)

~muʾmin ចំពោះអល់ឡោះនិងថ្ងៃបរលោក ពួកគេជាអ្នក

Caption

មិនធ្វើ អោយមានផលប៉ះពាល់ដល់អ្នកជិតខាងនោះទេ
(Riyad as-Salihin 308)

~muʾmin ចំពោះអល់ឡោះនិងថ្ងៃបរលោក ពួកគេមិនស្អប់ ពួក Ansar នោះទេ
(Jami` at-Tirmidhi 3906)

~muʾmin ចំពោះអល់ឡោះនិងថ្ងៃបរលោក ពួកគេមិនដក ខ្លួនក្នុងការប្រយុទ្ធក្នុងសមរភូមិនោះទេ ដោយពួកគេប្រយុទ្ធ
ទាំង ទ្រព្យសម្បត្តិ និងជីវិតរបស់ពួកគេ
(al-Quran 9:44)

~muʾmin ចំពោះអល់ឡោះនិងថ្ងៃបរលោក បើពួកគេបាន ខ្វែងគំនិតអំពីកិច្ចការអ្វីមួយ គឺពួកគេត្រូវឡប់ទៅមើលគម្ពីរ al-Quran និងស៊ុណ្ណះ ។
(al-Quran 4:59)

~muʾmin មិនទាន់មានជំនឿពេញលេញនោះទេបើសិននិយាយស្តីអសីលធម៌ ប្រព្រឹត្តទង្វើអសីលធម៌ ដាក់បណ្តាសាអ្នកដទៃ និងតែងតែបន្តុះបង្អាប់អ្នកដទៃ
(Riyad as-Salihin 1555)

~muʾmin មិនទាន់មានជំនឿពេញលេញនោះទេនៅពេលដែលមិនបានផ្តល់ភាពសុខសាន្តដល់អ្នកជិតខាង អំពីប្រការអាក្រក់របស់គាត់។
(Riyad as-Salihin 305)

~muʾmin មិនទាន់មានជំនឿពេញលេញនោះទេអ្នកជិតខាងរបស់គាត់ ដេកដោយគ្មានអាហារ ខណៈពួកគេបរិភោគបានឆ្អែត

~muʾmin ដែលមានជំនឿពេញលេញជាជនដែលចង់ឲ្យ បងប្អូនរបស់ពួកគេបានល្អដូចដែលពួកគេចង់បានសំរាប់ខ្លួនពួកគេផ្ទាល់

Caption

(Riyad as-Salihin 183)

~muʾmin ដែលពិតប្រាកដគឺពួកគេស្រឡាញ់រ៉ស៊ូលុលឡោះច្រើនជាងកូនចៅ ឪពុកម្តាយ និងសាច់ញាតិរបស់ពួកគេ

~muʾmin ដែលពិតប្រាកដ គឺមានជំនឿទៅលើ 4 ៖

1.គ្មានទេម្ចាស់មានតែអល់ឡោះមួយគត់
2.ណាព្វីមូហាំម៉ាត់គឺជាអ្នកនាំសារព្រះដែលបានបញ្ជូនមកប្រកបដោយការពិត
3.ការធ្វើឲ្យរស់ឡើងវិញបន្ទាប់ពីស្លាប់

4.ជោគវាសនាល្អនិងអាក្រក់ (Qadr)

(Musnad Ahmad 758)

~mu᾿min ដែលពិតប្រាកដជាមួយ mu᾿min ពិតប្រាកដ ប្រៀបដូចទៅនឹងឥដ្ឋនៃជញ្ជាំង ដែលពង្រឹងគ្នាទៅវិញទៅមក
(Sahih al-Bukhari 481, 222)

~mu᾿min ដែលពិតប្រាកដត្រូវបានគេប្រៀបធៀបទៅនឹង សត្វឃ្មុំដែលស៊ីអាហារដែលល្អមានអនាម័យ (លំអង និងទឹកដមផ្កា) បន្ទាប់មកវាផលិតចេញជាអ្វីដែលល្អ (ទឹកឃ្មុំ) គឺថា សត្វ ឃ្មុំនោះមិនបានផ្តល់ផលប៉ះពាល់នៅកន្លែងវាចុះស៊ីចំណីនោះទេដោយបរិភោគហើយផលិតផលិតផលឡើងវិញ ។

~mu᾿min ដែលពិតប្រាកដជាជនដែលចែករំលែកអ្វីដែលល្អទៅអ្នកដទៃ

~mu᾿min ដែលពិតប្រាកដនៅពេលពួកគេមានកំហុស ឬ បាបកម្មអ្វីមួយពួកគេប្រញាប់ក្នុងការសុំខមាលទោសចំពោះ អល់ឡោះជាម្ចាស់ និងបង្ហាញពីភក្តីភាពចំពោះអល់ឡោះ ។ ពួកគេប្រៀបដូចជាចុងស្រូវដែលឱននៅពេលមានខ្យល់ខ្លាំង ហើយងើបឡើងវិញនៅពេលខ្យល់រសាត់ទៅវិញ

~mu᾿min ដែលពិតប្រាកដគេប្រៀបធៀបទៅនឹងដើមល្មើ ដោយសារមែក និងផ្លែរបស់វាបង្កប់នូវផលប្រយោជន៍ជាបន្តបន្ទាប់ជាច្រើនដល់ជនណាមួយដែលរក្សាទំនាក់ទំនងជាមួយវា ឬពួកគេ គឺអាចទទួលបានផលល្អនោះ ។

~mu᾿min ប្រៀបបានទៅនឹងរុក្ខជាតិមួយ ដែលខ្យល់បក់ឥតឈប់ឈរ ទោះបីពួកគេតែងតែជួបទុក្ខលំបាកដោយការសាកល្បង (الْبَلَاءُ) ។ រីឯមនុស្សពុតត្បុតវិញ ប្រៀបបាននឹងដើម cedar tree ដែលមិនរង្គើរហូតដល់ត្រូវគេកាប់ចុះមកដី

(Mishkat al-Masabih 1542)

~mu᾽min ប្រៀបប្រដូចទៅនឹងផ្លែ الأُتْرُجَّةِ សំរាប់អ្នក mu᾽min សូត្រគម្ពីរ al-Quran

»អ្នកមានជំនឿសូត្រគម្ពីរវាផ្តល់ប្រយោជន៍ជាងអ្នកមានជំនឿដែលមិនសូត្រគម្ពីរដូចជាត្រូវបានប្រៀបធៀបទៅនឹងផ្លែឈើដែលមានក្លិននិងរសជាតិឆ្ងាញ់ (ផ្លែ الأُتْرُجَّةِ) និង អ្នកមានជំនឿដែលមិនសូត្រគម្ពីរដូចជាផ្លែល្មើគ្មានក្លិនទេប៉ុន្តែរសជាតិរបស់វាផ្អែម ។
(Riyad as-Salihin 995)

~mu᾽min ប្រៀបប្រដូចទៅនឹងផ្លែ الأُتْرُجَّةِ សំរាប់អ្នក mu᾽min សូត្រគម្ពីរ al-Quran និង អនុវត្តតាមគម្ពីរ ហើយ
mu᾽min ដែលមិនសូត្រគម្ពីរ al-Quran តែអនុវត្តតាមគម្ពីរ គឺដូចទៅនឹងផ្លែល្មើ
(Mishkat al-Masabih 2114)

~mu᾽min នៅក្នុងសុបិនរបស់រ៉ស៊ូលុលឡោះ ﷺ ត្រូវបានគេប្រៀបទៅនឹង៖

1.mu᾽min ប្រៀបដូចទៅនឹងដាវដែលបាក់ខូច គឺបង្ហាញអំពី ការស្លាប់របស់អ្នក mu᾽min នៅសមរភូមិ Uhud

2.mu᾽min ប្រៀបដូចទៅនឹងដាវដែលល្អ (បន្ទាប់ពីខូចរួច)
គឺបង្ហាញអំពី Conquest of Mecca ដែលជាថ្ងៃដែល អល់ឡោះបានជួយឲ្យមានជ័យជំនះ និងជាថ្ងៃនៃការរួបរួមរបស់អ្នក mu᾽min ទាំងឡាយ ។

3.mu᾽min ប្រៀបដូចទៅនឹងសត្វគោ (អល់ឡោះផ្តល់ផលបុណ្យ) គឺបង្ហាញអំពីអ្នកស្លាប់ក្នុងផ្លូវរបស់ព្រះនៅសមរភូមិ Uhud ដែលត្រូវបានអល់ឡោះផ្តល់ផលបុណ្យសំរាប់ពួកគេ ។
(Sahih al-Bukhari 4081)

~Jew នាសម័យរ៉ស៊ូលុលឡោះ ﷺ ចំនួន 10 នាក់ (ក្នុងចំណោមមេរបស់ពួកគេ) ជឿទៅលើគាត់ នឹងធ្វើឲ្យ Jews ទាំងឡាយជឿទៅលើគាត់ជាមិនខាន ។

(Sahih al-Bukhari 3941)

~ទ្រព្យសម្បត្តិរបស់គ្រួសារ Kisra ដែលស្ថិតក្នុងរាជវាំងស ត្រូវបានបែងចែកសំរាប់អ្នក Muslims ឬ អ្នក muʾmin

(Sahih Muslim 2919 b)

~‘Umar bin Khattab ត្រូវបានគេហៅថាជាមេដឹកនាំនៃអ្នកមានជំនឿ أَمِير ٱلْمُؤْمِنِين

~’Aishah ប្រពន្ធរបស់ណាព្ជីម៉ូហាំម៉ាត់ ត្រូវបានគេហៅថាជាម្តាយនៃអ្នកមានជំនឿ

~Fatima កូនស្រីរបស់ណាព្ជីម៉ូហាំម៉ាត់ ត្រូវបានក្លាយជាមេដឹកនាំស្ត្រីនៅឋានសួគ៌



Caption